កាសែត ខ្មែរប៉ុស្តិ៍
The Khmer Post Newspaper
ISSUE 46 October 30th -November 12th 2009



សូមអញ្ជើញលោកអ្នកអានអត្ថបទជាភាសាអង់គ្លេស នៅទំព័រខាងក្នុង ដែលបានដកស្រង់ចេញពីសារព័ត៌មាន The Cambodia Daily នៅប្រទេសកម្ពុជា ។

# ខួបទី ១៨ នៃសន្ធិសញ្ញាក្រុងប៉ារីស

**ក្រុងប៉ារីស, ខ្មែរប៉ុស្តិ៍ : មាជ សុវណ្ណារ៉ា**

••• បងប្អូនខ្មែរនៅប្រទេសបារាំងចំនួនរាប់រយនាក់បានជួបជុំគ្នានៅទីលាននៃសិទ្ធិមនុស្ស ត្រូកាដេរ៉ូ នាទីក្រុងប៉ារីសកាលពីថ្ងៃអាទិត្យ ទី25 តុលា ឆ្នាំ២០០៩ បំណង

**តទៅទំព័រទី ១២**




## ស្នាដៃម៉ូតខោអាវកូនខ្មែរកំពុងទាក់ទាញតារា Holly wood

**Holly Wood, ខ្មែរប៉ុស្តិ៍ : ស្រីនាថ**

•••នៅក្នុងសកម្មភាពដែលមើលទៅហាក់កំពុងតែមមាញឹក ដោយមិនទំនេរដៃជាមួយជើងជាន់ម៉ាស៊ីនដេរនាពេលរាត្រីក្នុងផ្ទះរបស់យុវជន រ៉េមី ហូ ហៅ រតនា អាយុ28 ឆ្នាំ បានរ៉ាយរ៉ាប់ប្រាប់អ្នកកាសែតខ្មែរប៉ុស្តិ៍ ឱ្យដឹងថា ខ្លួនគេកំពុងតែរត់

**តទៅទំព័រទី ០៥**


យុវជនខ្មែរ រ៉េមី ហូ ម្ចាស់ស្នាដៃតែងម៉ូត និងកែច្នៃកាត់សំលៀកបំពាក់ (រូបថត វ៉ាន់ថា ឯល)

## មានអ្វីប្លែកនៅហ្វីឡាដែលហ្វៀ

**I. ចាក់ថ្នាំ :** សម្រាប់មនុស្សចាស់ (៥០ ឆ្នាំឡើង) និងអ្នកមានជម្ងឺជាប្រចាំ សូមកុំភ្លេចទៅចាក់ថ្នាំការពារជម្ងឺគ្រុនក្តៅផ្តាសាយ Flu Shot សំរាប់រដូវរងារដែលកំពុងតែមកដល់ ។

សមាគមខ្មែរ បានប្រកាសអញ្ជើញឱ្យមកទទួលការចាក់ថ្នាំខាងលើ នៅថ្ងៃសៅរ៍ ទី៩ វិច្ឆិកា ឆ្នាំ២០០៩ នៅវេលាម៉ោង ១០ព្រឹកដល់ម៉ោង ១២ ។

**តទៅទំព័រទី ០៣**







## ខ្មែរក្រៅប្រទេសចូលរួមក្នុងកម្មវិធី "អង្គប្រជុំជំរះវិសាមញ្ញក្នុងតុលាការកម្ពុជា"

***presented by:***
*ASRIC and The APA Institute at New York University,*

***in cooperation with:***
*The Khmer Post – East Coast*
*The Cambodian Association of Greater Philadelphia*
*Mental Health Association of Southeastern Pennsylvania*

នាចន្លោះឆ្នាំ១៩៧៥-៧៩ ខ្មែរក្រហមបានប្រព្រឹត្តការសម្លាប់មនុស្ស ដែលគេអាចប៉ាន់ចំនួនជាង២លាននាក់ ដោយធ្វើទារុណកម្ម ដោយបង្អត់អាហារ ឬ ដោយសម្លាប់ចោល ។ ជាង៣០ឆ្នាំក្រោយមក ការឈឺចាប់នៅតែបន្ត ទោះជាខ្មែរមកនៅក្រៅស្រុកហើយក៏ដោយ ក៏នៅតែប្រឈមមុខតទល់ស្វែងរកបញ្ចប់នូវអតីតកាលដ៏ឈឺចាប់ ស្វែងរកអត្តសញ្ញាណផ្ទាល់ អត្តសញ្ញាណរបស់ជាតិ និងអត្តសញ្ញាណនៃព្រលឹងរបស់ខ្លួន ដើម្បីឱ្យបានក្លាយជាជនមានឋាមពល និង ភាពជាសះស្បើយ និងគេបាន ។

ASRIC បានរៀបចំព្រឹត្តិការណ៍នេះឡើង ដើម្បីឱ្យអ្នកដែលរស់ពីស្លាប់ដោយអំពើឧក្រិដ្ឋកម្មនោះ មានលទ្ធភាពចូលរួមនិយាយពីរឿងបទពិសោធន៍ជីវិតរបស់ខ្លួន ដែលនេះជាវិធីមួយមានសារសំខាន់ នាំទៅរកការដោះ ការជាសះស្បើយ និង ការពង្រឹងដល់សហគមន៍ខ្មែរទាំងមូលបាន ។ ដោយសារតែជាផ្នែកមួយនៃវិធីព្យាបាល ASRIC នឹងផ្ដល់នូវឱកាសមួយ សម្រាប់អ្នកដែលនៅរស់ពីស្លាប់ទាំងនោះ ឱ្យអាចបញ្ចេញសម្លេងឱ្យគេបានឮ នៅទីជំរះក្ដីចំពោះមេខ្មែរក្រហម ជាផ្លូវការ ដែលត្រូវប្រព្រឹត្តទៅនៅអង្គប្រជុំជម្រះវិសាមញ្ញក្នុងតុលាការកម្ពុជា ដោយជួយលោកអ្នករងគ្រោះទាំងនោះ ឱ្យអាចបញ្ចេញភស្តុតាង ដាក់ជាបណ្ដឹងជូនទៅតុលាការជម្រះក្ដីបាន ។

### កម្មវិធី

ថ្ងៃសុក្រ និងថ្ងៃសៅរ៍ ទី១៣ -១៤ ខែវិច្ឆិកា ឆ្នាំ២០០៩ ពីម៉ោង ១០:០០ព្រឹក ដល់ ៦:០០ល្ងាច
ណែនាំអំពីការងាររបស់ ASRIC នឹងដំណើរការជំនុំជំរះរបស់តុលាការពិសេសនៅកម្ពុជា
បុគ្គលិក ASRIC នឹងជួយលោកអ្នក ក្នុងការបំពេញសំណុំរឿងរងគ្រោះ ដើម្បីដាក់បញ្ជូនទៅតុលាការ

### ទីកន្លែងប្រជុំ

*Pro-Act*
*444 North 3rd St. Suite 307*
*Philadelphia, Pa 19123*

**RSVP** by November 9 by sending an e-mail message to: apa.asric-khmer.justice@nyu.edu

**For more information:**
ASRIC - www.apa.nyu.edu/ click on "Research" and select "Special Projects."

(តមកពីទំព័រទី ០១) **មានអ្វីប្លែកនៅហ្វីឡាដែលហ្សៀ...**

នៅទីស្នាក់ការខាងត្បូង ២៤១៦ ផ្លូវលេខ៧ (ខាងត្បូង) ចាប់ពីម៉ោង ១ ដល់ម៉ោង៣រសៀល ។

នៅទីស្នាក់ការខាងជើង ៥៤១២ ផ្លូវលេខ៥ (ខាងជើង) គឺជាការចាក់ថ្នាំ ដោយឥតយកកម្រៃ ដើម្បីសុខភាពល្អ ។

## II.ខ្មែរហ្វីឡាប្តឹងខ្មែរក្រហម :

ខ្មែររងគ្រោះកាលពីរបបវាលពិឃាតខ្មែរក្រហម ឥឡូវនេះ មានឱកាសនឹងដាក់ពាក្យបណ្តឹងទៅ " អង្គជំនុំជំរះវិសាមញ្ញក្នុងតុលាការកម្ពុជា " បានហើយ ។ នៅហ្វីឡាដែលហ្សៀ ថ្ងៃសុក្រ និងថ្ងៃសៅរ៍ ទី១៣-១៤ វិច្ឆិកាខាង មុខ និងក្រុមមេធាវី និងអ្នកឯកទេសបណ្ឌិតខាងចិត្តសាស្ត្រ នឹងមកជួយរៀបចំបែបបទជូនលោកអ្នកឱ្យអាចក្លាយជាដើមបណ្តឹងចំពោះទង្វើឧក្រិដ្ឋរបស់ក្រុមខ្មែរក្រហម ទៅតុលាការអន្តរជាតិនៅកម្ពុជា ។

ខ្មែរប៉ុស្តិ៍ សមាគមខ្មែរ និង MHASP បានទទួលរៀបចំកម្មវិធីដ៏មានសារៈសំខាន់ សម្រាប់ផ្សះផ្សាការឈឺចាប់របស់អ្នកបានសល់ពីការសម្លាប់រង្គាល ឱ្យលោកអ្នកមាននាំនូវសក្សីកម្ម និងភស្តុតាងដាក់ស្តែងទៅបើកមុខមេដឹកនាំខ្មែរក្រហម ដែលកំពុងនៅក្នុងក្រញ៉ាំដៃនៃតុលាការអន្តរជាតិ បង្ហាញការពិត នាំសេចក្តីស្ងប់មកដាក់ខ្លួនឱ្យបាន ហើយនាំសហគមន៍ឱ្យអាចអភិវឌ្ឍន៍បានទៀតផង ។

អាស័យដ្ឋាន : Pro-Act 444 North 3rd. Street Philadelphia, PA 19123.

ចង់បានព័ត៌មានបន្ថែមសូមទាក់ទងទៅ

ខ្មែរប៉ុស្តិ៍ : 267-253-3947

សមាគមខ្មែរ : 215-324-4070

MHASP : 215-751-1800 បន្ត 557.

## III. រាត្រីកំសាន្តជំនួយដល់ការសិក្សា

រាត្រីសមោសរមួយនឹងត្រូវរៀបចំឆ្នាំនេះ នៅវើជីនៀរ សម្រាប់សំរួលថវិកាទៅផ្តល់ជូននិស្សិតខ្មែរដែលបានរៀនពូកែ តែក្រីក្រឱ្យអាចបន្តការសិក្សាទៅមហាវិទ្យាល័យបាន ។ គំនិត




នេះបានផ្តួចផ្តើមឡើងដោយវេជ្ជបណ្ឌិត សំរ៉ង ខ្មៅ នៅញូវយ៉ក សហរដ្ឋអាមេរិក បានបង្កើតមូលនិធិមួយឈ្មោះថា មូលនិធិសម្រាប់ការសិក្សា "ហើយមូលនិធិនេះក៏ធ្លាប់ចូលមកហ្វីឡាដែល-ហ្សៀ កាលពីឆ្នាំមុន ដើម្បីធ្វើរាត្រីកំសាន្តប្រមូលថវិកាដូចគ្នានោះដែរ ។

សប្បុរសជនដែលចង់បន្តការចូលរួមសកម្មភាពមនុស្សធម៌ដល់និស្សិតខ្មែរឆ្នាំនេះទៀត អាចទៅចូលរួមក្នុងរាត្រីកំសាន្តដ៏មានប្រយោជន៍ដល់ប្រទេសខ្មែរ នៅថ្ងៃសៅរ៍ទី ៣១ ខែតុលា ឆ្នាំ ២០០៩ នៅភោជនីយាដ្ឋាន "ហាវេសមូន"

7260 Arlington Bovleverd
Falls Church. VA 22042

សំបុត្រចូល $40 ដើម្បីជាការកំសាន្តជាមួយតន្ត្រី "ហេឡូ" ផង នឹងដើម្បីជាជំនួយដល់ការសិក្សារបស់យុវជនយុវនារីខ្មែរក្រីក្រផង ។

ទូរស័ព្ទ - សំរ៉ង ខ្មៅ (516) 974-9616,
- សុភា ទេព (571) 218-9513

## IV.ជួបជុំគ្នានៅរាត្រីសមោសរ "មូលនិធិកុមារខ្មែរ"

ថ្ងៃសៅរ៍ទី ៧ ខែវិច្ឆិកា ឆ្នាំ ២០០៩ នៅភោជនីយដ្ឋាន ម៉ាក់ស៊ីម សាយគ្គន Maxim Saigon Restaurant, 612-632 Washington




Avenue- PhiladelPhia "មូលនិធិកុមារខ្មែរ" នឹងរៀបចំរាត្រីសមោសររបស់ខ្លួន ដើម្បីរៃអង្គាសថវិកា យកទៅជួយដល់កុមារក្រីក្រ នៅកម្ពុជា ដើម្បីឱ្យអាចមានជីវភាពសមរម្យដូចគេដូចឯងបាន ។ រូបភាពនៃជីវភាពលំបាកលំបិនជាច្រើនបានត្រូវផ្សព្វផ្សាយក្នុងវេបសាយ :

WWW.CAMBODIAN CHILDRENS FUND.ORG

ភ្ជាប់ដោយការបញ្ជាក់ពីគោលបំណងមនុស្សធម៌នៃអង្គការ មូលនិធិកុមារខ្មែរផង ។ បើលោកអ្នកចង់ចូលរួមក្នុងការកំសាន្តប្រកបដោយគំនិតមនុស្សធម៌នេះ សូមអញ្ជើញទៅចូលរួម ។ តម្លៃសំបុត្រ $55 ដុល្លារ ក្នុងម្នាក់ ហើយបើចង់ទាក់ទងអ្នកគ្រប់គ្រងទូរស័ព្ទ បូណា វ៉ាយផ្កាយ (215) 940-1466.

## V. ផ្លាស់ប្តូររចនាសម្ព័ន្ធគណៈបក្សសិទ្ធិមនុស្សនៅហ្វីឡា

នៅចុងខែតុលានេះ សាខាហ្វីឡាដែលហ្សៀរបស់គណបក្សសិទ្ធិមនុស្ស បានបង្ហាញពីសហគមភាពថ្មីនៃអ្នកគ្រប់គ្រងរបស់ខ្លួន ។ លោក ញូយ ចំរើន ដែលជាប្រធាននៅរដ្ឋផ្ទៃស៊ីវេនា ផងនឹងជាប្រធានប្រចាំទ្វីបអាមេរិកខាងជើងផង បានប្តូរកន្លែងទៅរស់នៅក្រុង Las Vegas វិញ ដូច្នេះតំណែងប្រធានទៅ រដ្ឋផែនស៊ីវេនា នោះត្រូវផ្ទេរទៅឱ្យលោក ពេជ វិសាកា អនុប្រធាន លោក ហ៊ូ គេង ជាអគ្គលេខាធិបណ្តោះអាសន្នលោក អ៊ុម លឿម ។


ញូយ ចំរើន
ពេជ្រ វិសាកា

នៅហ្វីឡាដែលហ្វីយ៉ានេះ មានគណបក្សនយោបាយខ្មែរបីដែលឈរជើងយ៉ាងមាំ គឺគណបក្សសិទ្ធិមនុស្ស.គណបក្សប្រជាជន និងគណបក្ស សម រង្ស៊ី គឺជាជម្រកសំខាន់ជាងគេនៅក្រៅប្រទេសសម្រាប់គណបក្សពីរដំបូង រីឯជម្រកសំខាន់របស់គណបក្ស សម រង្ស៊ី គឺនៅឡូវែលរដ្ឋម៉ាសាឈូកែវ ។

## VI. បង្កើតថាមពលម្តាយឪពុកនៅហ្វីឡាខាងត្បូង

កម្មវិធី "ភីក" របស់ MHSP បានត្រូវបើថ្មីមួយទៀតសម្រាប់សហគមន៍ខ្មែរ ផ្នែកខាងត្បូងហ្វីឡាដែលហ្សៀ ។ កម្មវិធីនេះមានបំណងបង្ហាត់បង្ហាញមាតាបីតាពីធនធាន ដែលអាចប្រើប្រាស់បានសម្រាប់ដឹកនាំកូនចៅក្នុងគ្រួសារឱ្យបានប្រសើរនៅហ្វីឡាដែលហ្សៀនេះ សហគមន៍ខ្មែរមានប្រមាណជាង ២ម៉ឺននាក់ មានបន្ទុកគ្រួសារធ្ងន់ធ្ងរ មានការងារតិចតួច ប្រឈមមុខនឹងការអប់រំកូនចៅស្ទើរគ្រប់គ្នា ធ្វើឱ្យសហគមន៍នេះបាក់មុខមាត់ពីសេចក្តីសម្រេចនានារបស់ក្រុង ។


ដាញែល ពៅ

លោក ដាញែល ពៅ នាយករងវិទ្យាល័យ "ហ្វ័រណេស"បាមសំដែងកាលពីថ្ងៃទី ២១ ខែតុលា នៅក្នុងកម្មវិធី"ភីក"នៅវិហា មីណូណៃថា" កូនសិស្សខ្មែររៀនបានល្អរហូតដល់ថ្នាក់ទី ៨ ទី៩ បន្ទាប់ពីនោះទៅឪពុកម្តាយមានការលំបាកនឹងគ្រប់គ្រងធ្វើឱ្យយុវជនប្រមាណ ៧១% ខនខានបោះបង់សាលារៀនចោល"...

លោក ម៉ម យីន សមាជិកក្រុមគាំទ្រគ្រួសារខ្មែរបានអំពាវនាវនៅពេលជាមួយគ្នានោះដែរ "ឱ្យគ្រួសារខ្មែររួបរួមពួតដៃគ្នា ដើម្បីទាមទារឱ្យមានការទទួលស្គាល់ និងការពារគ្រួសារខ្មែរនៅហ្វីឡាឱ្យមានជំហររឹងប៉ឹងមាំមួនឱ្យបានច្រើនគ្នា"...

កម្មវិធី"ភីក"កំពុងតែបន្តយនៅព្រះវិហារមីណូណៃ ចំនួន ៨ សប្តាហ៍ រហូតដល់ដើមខែធ្នូ សម្រាប់បំរើម្តាយឪពុកខ្មែរនៅហ្វីឡា ភាគខាងត្បូង ៕

# តំណាងរាស្ត្រសហរដ្ឋអាមេរិកថ្កោលទោសចំពោះអំពើពុករលួយនៅកម្ពុជា



ដោយ : ម៉ម យ៉ឹន

•••នៅពេលថ្មីៗនេះ មានសភាតំណាងសហរដ្ឋអាមេរិក មួយចំនួន បានថ្កោលទោសពីការរីករាលដាលអំពើទុច្ចរិត ពុករលួយនៅក្នុងកម្ពុជានោះដែរ ។ ទើបនាំគ្នាចេញសេចក្តីសម្រេចលេខ ៨២០ នោះ បានធ្វើការអត្ថាធិប្បាយនូវចំណុចសំខាន់ៗជាច្រើន ដោយសំអាងហេតុដូចខាងក្រោមនេះ :

**១-** រាជរដ្ឋាភិបាលកម្ពុជា បានប្រើប្រាស់យុត្តិវិធីកំហែងគម្រាមដូចជា ការសម្លាប់អ្នកប្រឆាំង និងបង្ក្រាបក្រុមអ្នកនយោបាយប្រឆាំង។

**២-** របាយការណ៍របស់អង្គការឃ្លាំមើលសិទ្ធិមនុស្ស ( Human Right Watch ) បានឱ្យដឹងថា លោក ឃឹម សម្បូរណ៍ អ្នកសារព័ត៌មាននៃកាសែត មនសិការខ្មែរ ដែលគាំទ្រគណបក្ស សម រង្ស៊ី និងកូនប្រុសគាត់ ត្រូវបានគេបាញ់សម្លាប់នៅចំកណ្តាលក្រុងភ្នំពេញ នៅថ្ងៃទី១១ ខែកក្កដា ឆ្នាំ ២០០៨ ការបាញ់ប្រហារនេះ គឺក្នុងគោលបំណងចង់ធ្វើសារថាកុំឱ្យមានអ្នកកាសែតទាក់ទង ឬចូលរួមជាមួយគណបក្សប្រឆាំងឡើយ ។

**៣-** ប្រព័ន្ធតុលាការនៅកម្ពុជា មានការឃុបឃិតប្រព្រឹត្តអំពើទុច្ចរិត ពុករលួយ ហើយត្រូវបានប្រើប្រាស់ជាឧបករណ៍ដោយគណបក្សកាន់អំណាច ដើម្បីបំបិទមាត់គណបក្សប្រឆាំង។

**៤-** អង្គការ FREEDOM HOUSE បានចាត់ទុកប្រទេសកម្ពុជា ក្នុងចំណាត់ថ្នាក់លេខពុំមានសេរីភាពឡើយ ។

**៥-** របាយការណ៍របស់អង្គការ Global Witness បានឱ្យដឹងថា ប្រទេសកម្ពុជា ត្រូវបានដឹកនាំដោយក្រុមខ្សែស្រឡាយអ្នកលួចជាតិ ។ ពួកគេមានទ្រព្យសម្បត្តិស្តុកស្តម្ភ ដោយសារតែដណ្តើមរឹបអូសយកទ្រព្យសម្បត្តិរដ្ឋ ជាពិសេស ការកេងប្រវ័ញ្ចយកផលប្រយោជន៍ពីសម្បត្តិធម្មជាតិ ។

**៦-** របាយការណ៍លោក យ៉ាស្ហ ហ្គាយ (Yash Ghai) អតីតតំណាងពិសេសនៃអគ្គលេខាធិការអង្គការសហប្រជាជាតិ ទទួលបន្ទុកផ្នែកសិទ្ធិមនុស្សនៅកម្ពុជា ដាក់ជូនក្រុមប្រឹក្សាសិទ្ធិមនុស្សនៃ អ.ស.ប ដោយបានលើកឡើងថា មិនចាំបាច់ជាអ្នកជំនាញយល់ដឹងជ្រៅជ្រះខាងសិទ្ធិមនុស្ស ដើម្បីទទួលស្គាល់ថា មានការរំលោភសិទ្ធិមនុស្សនៅក្នុងប្រទេសកម្ពុជានោះ។ គឺគេអាចមើលឃើញដោយងាយនូវគោលការណ៍ទាំងឡាយរបស់រដ្ឋាភិបាល ដែលមានចរិតវិទ្ធង្សនា ឬបន្ទុចបង្អាក់ការរីកចំរើនចំណុចសំខាន់ៗ នូវដំណើរការឆ្ពោះទៅរកលិទ្ធិប្រជាធិបតេយ្យ និងនីតិរដ្ឋ ។ គោលនយោបាយដែលប៉ះពាល់ដល់ធនធានផ្នែកសេដ្ឋកិច្ច ក៏ដូចជាជីវភាពរស់នៅរបស់ប្រជាពលរដ្ឋ និងគោលនយោបាយទាំងឡាយ ដែលនាំឱ្យប្រជាពលរដ្ឋបាត់បង់សេចក្តីថ្លៃថ្នូរ ។

**៧-** ករណីលោកស្រី មួរ សុខហួរ តំណាងរាស្ត្រនៃគណបក្ស សម រង្ស៊ី ត្រូវបានសភាដកអភ័យសិទ្ធិ និងដាក់ទោសពិន័យ ដោយសារតែគាត់រិះគន់លោកនាយករដ្ឋមន្ត្រីខ្មែរ ហ៊ុន សែន ដោយចំ ។

៨- ដូចដែលលោកស្រី មួរ សុខហួរ តំណាងរាស្ត្រនៃគណបក្ស សម រង្ស៊ី បានថ្លែងប្រាប់នៅចំពោះមុខគណៈកម្មាធិការសិទ្ធិមនុស្ស ថមលេនថូស (Tom Lantos) កាលពីថ្ងៃទី១០ ខែកញ្ញា ឆ្នាំ២០០៩ ដែលថាលោកស្រីជាបុគ្គលមួយរូបក្នុងចំណោមមនុស្សស្លូតត្រង់រាប់ពាន់នាក់ មានអ្នកកាសែត អ្នកដឹកនាំសហជីព គ្រូបង្រៀន និងអ្នកស្រុក ដែលត្រូវបានកាត់ទោសដោយតុលាការខ្មែរ ដែលគេរាល់គ្នាបានដឹងឮថា ប្រព្រឹត្តអំពើពុករលួយ ពុំមានសមត្ថភាព និងធ្វើតាមតែបញ្ជារបស់រដ្ឋាភិបាល និងអ្នកកាន់អំណាច មានប្រាក់កាសតែប៉ុណ្ណោះ ។

**៩-** មន្ត្រីរដ្ឋាភិបាលខ្មែរ ជាញឹកញយតែងតែលូកដៃក្នុងរបររកស៊ីជួញដូរផ្លូវភេទ ហើយបញ្ហាពុករលួយបានធ្វើឱ្យអំពើជួញដូរមនុស្សកាន់តែមានសភាពធ្ងន់ធ្ងរ ។

**១០-** របាយការណ៍ប្រចាំឆ្នាំ របស់ក្រសួងការបរទេសសហរដ្ឋអាមេរិក សម្រាប់ឆ្នាំ ២០០៩ បានឱ្យដឹងថា អំពើពុករលួយ ដែលរីកសាយភាយខ្លាំង នៅក្នុងប្រទេសកម្ពុជា ហើយក្នុងការជួញដូរផ្លូវភេទនេះ ត្រូវបានគេជឿថា មានការជាប់ជំពាក់ ពាក់ព័ន្ធនឹងប៉ូលីស មន្ត្រីតុលាការដោយផ្ទាល់ ឬដោយប្រយោល ។

**១១-** អាជ្ញាធរមូលដ្ឋាន និងមន្ត្រីរដ្ឋាភិបាលតែងតែទទួលយកប្រាក់សំណូក និងជំរិតទារប្រាក់ពីម្ចាស់បនពេស្យា ដើម្បីអាចនៅតែបន្តបើកកន្លែងផ្ទះបនបាន ។

សេចក្តីសម្រេចលេខ ៨២០ បានបញ្ជាក់សេចក្តីដោយសរសេរថា អាស្រ័យដូចបានរៀបរាប់ខាងលើ សភាជាតិសហរដ្ឋអាមេរិក សូមធ្វើការថ្កោលទោសចំពោះការគាបសង្កត់ទៅលើក្រុមអ្នកប្រឆាំង ពីសំណាក់គណបក្សប្រជាជនកម្ពុជា ដែលកំពុងតែកាន់អំណាច ហើយសូមអំពាវនាវសុំឱ្យរដ្ឋាភិបាលខ្មែរ និងគ្រប់អង្គការអន្តរជាតិ ដោះស្រាយ និងរកវិធានការជាក់ស្តែង ដើម្បីប្រឆាំង និងទប់ស្កាត់ចំពោះស្ថានភាពធ្ងន់ធ្ងរ ស្តីពីការជួញដូរមនុស្សនៅកម្ពុជានេះ ។

ការចេញសេចក្តីសម្រេចលេខ ៨២០ របស់សភាជាតិសហរដ្ឋអាមេរិក ពេលនេះ គឺជាវិធានការមួយសំខាន់ណាស់ ដើម្បីបញ្ជាក់ប្រាប់ដល់នាយករដ្ឋមន្ត្រី និងមន្ត្រីគ្រប់ជាន់ថ្នាក់នៃរដ្ឋាភិបាលខ្មែរ ឱ្យព្រមទទួលស្គាល់នូវអំពើ និងការប្រព្រឹត្តរបស់ខ្លួន ទៅលើជនជាតិខ្មែរ ដែលកំពុងតែរងទុក្ខវេទនា ដោយសារតែបាត់បង់ស្ទើរតែអស់រលីងនូវសិទ្ធិសេរីភាព សិទ្ធិអំណាចជាខ្មែរម្ចាស់ស្រុក ម្ចាស់ប្រទេស ពីព្រោះតែរដ្ឋាភិបាលខ្មែរ បានបើកដៃ និងចូលរួមដៃ រួមចិត្តជាមួយជាតិសាសន៍ដទៃ មានយួន និងសៀមជាដើម ដើម្បីគិតគូខ្លាំងទៅលើផលប្រយោជន៍ផ្ទាល់ខ្លួន ហើយហ៊ានប្រព្រឹត្តដោយឥតកោតក្រែង ប្រគល់សិទ្ធិអំណាចគ្រប់បែបយ៉ាងទៅឱ្យជាតិសាសន៍ដទៃទាំងនោះ ៕

The Khmer Post Directory
East Coast Publication
Regional Editor : Pin Samkhon
Email : pinsamkhon@gmail.com
Writers : Mam Yin
Kim Phean
Im Loeurm
Bopea Chum
Advertising
Marketing Manager:
Sabane Thach
Phone : 267-253-3947
Email : sabane.thach@gmail.com
West Coast Publication
RegionalEditor : Sovannara Meach
Writers : Kim Saroeurn
Ra Neat
Sophea Rith
Mey Sampos
Chan Kosal
Sovann Rith
Phone: (562) 313-2129

(តមកពីទំព័រទី ០១)

# ស្នាដៃម៉ូតខោអាវកូនខ្មែរ

ប្រណាំងជាមួយពេលវេលា ដែលកំពុងដើរទៅមុខ ដោយរូបគេបញ្ជាក់ថា មួយថ្ងៃទៅមួយថ្ងៃយុវជនវ័យក្មេងកំលោះនេះមិនសូវជាទំនេរដៃប៉ុន្មានទេ ក្រៅតែពីប្រើគំនិតបង្កើតម៉ូតតែងច្នៃដោយខ្លួនឯងនោះ និងកាត់តម្រូវទៅតាមម៉ូយចង់បាន ដែលភាគច្រើនជាតារាកុន និងអ្នកចម្រៀងល្បីៗនៅក្រុមហ៊ុន Hollywood ដែលពួកគេកំពុងតែចាប់អារម្មណ៍ ដោយការទាក់ទាញពីម៉ូតសម្លៀកបំពាក់ប្លែកៗ របស់យុវជន រ៉េមី ។

ក្នុងភាពស្នាមញញឹមសំដីមួយៗជាភាសាខ្មែរ បអង់គ្លេស យុវជនដែលឈ្មោះខ្មែរហៅ រតនា បាននិយាយថា "ខ្ញុំផ្ដើមអាជីពជាអ្នកតែងម៉ូតខោអាវស្រី-ប្រុសតាំងពីឆ្នាំ2007 ដោយមានការគាំទ្រពីសំណាក់មិត្តភ័ក្ដិបរទេសមិនថា ជនជាតិអាស៊ី ឬបស្ចិមប្រទេសឡើយ ដែលខ្ញុំមានទំនាក់ទំនងតាំងពីខ្ញុំនៅធ្វើការជាមួយក្រុមហ៊ុនទូរស័ព្ទ Helio Phone ដោយមានតួកុន និងអ្នកចម្រៀងល្បីៗបានស្គាល់ខ្ញុំក្នុងនាមខ្ញុំមានតួនាទីជាអ្នកគ្រប់គ្រងផ្នែកជួសជុល និងដោះដូរត្រួតពិនិត្យដល់ទូរស័ព្ទពួកគេ24ម៉ោង ប្រសិនបើទូរស័ព្ទពួកគេមានបញ្ហារអាក់រអួល ឬខូចអ្វីនោះ ។





ដែលឱកាសនោះហើយ ធ្វើឱ្យខ្ញុំមានទំនាក់ទំនងល្អជាមួយតួកុន Tom Cruise អ្នកចម្រៀង Kenyewest អ្នកចម្រៀង Pharrell Williams និង Snop Dogg ជាដើម ដែលពួកគេគិតថា បើខ្ញុំធ្វើអ្វីគេនឹងជួយគាំទ្រ និងផ្សព្វផ្សាយដើម្បីខ្ញុំ" ។ Remy Hou ថ្លែងថា "ខ្ញុំមានមោទនភាពដែលបានកើតជាកូនខ្មែរ ដោយចូលប្រឡូកជាមួយជាតិសាសន៍ដទៃ ហើយមានការគាំទ្រពីសំណាក់ពួកគេ ដែលនេះជាសេចក្ដីថ្លៃថ្នូរនៃជីវិតខ្ញុំ ក៏ដូចជីវិតគ្រួសារខ្ញុំ និងជីវិតខ្មែរទាំងអស់គ្នា" ។

កាលពីថ្ងៃទី20 ខែតុលា ឆ្នាំ 2009 នៅ ទីក្រុង Santa Monica យុវជន Remy បានបើកពិធីបង្ហាញម៉ូតសម្លៀកបំពាក់របស់ខ្លួន ចំនួន30ឈុត ដោយមានកម្លោះស្រស់ស្រីស្អាត ចូលរួម19នាក់ ចម្រុះជាតិសាសន៍ស្បែកពាក់ខោអាវរបស់អ្នកច្នៃតែងម៉ូត Engineered by Remy ។

ដែលនៅក្នុងរាត្រីនោះមានមនុស្សភាគច្រើនបំផុតជាយុវវ័យបាននាំគ្នាសង្សារចូលរួមទស្សនាជិត 200នាក់ ដោយបង្ហាញការទះដៃគាំទ្រអ្នកបង្ហាញម៉ូត និងការចាប់អារម្មណ៍ពីម៉ូតសម្លៀកបំពាក់មិនថាម៉ូតសម្រាប់ស្លៀកក្នុងរដូវក្ដៅ រដូវរងារ ឬរំហើយឡើយ ដោយរួម ជាមួយម៉ូតកែច្នៃនៃខ្សែក្រវ៉ាត់ប្រុស-



ស្រីគួរឱ្យចាប់អារម្មណ៍ ។

ភ្ញៀវចូលរួមបាននិយាយស្ទើរគ្រប់គ្នាពីចំណាប់អារម្មណ៍របស់ពួកគេថា ស្លាកសញ្ញា (Logo) ដែលរំលេចនៅតាមម៉ូតខោអាវ ឬខ្សែក្រវ៉ាត់មិនថាសម្លៀកបំពាក់ប្រុស-ស្រី ឡើយដែលជាការទាក់ទាញពួកគេ ។

ស្លាកសញ្ញា (Logo) នោះមាន2ពណ៌ធម្មជាតិខៀវ និងក្រហម ដែលពណ៌ខៀវពីរអមសងខាងពណ៌ក្រហមដូចជាទង់ជាតិខ្មែរ ប៉ុន្តែគ្រាន់តែអត់រូបអង្គរវត្តតែប៉ុណ្ណោះ ។

យុវជន Remy ហៅ រតនា បានប្រាប់យើងថា ហេតុអ្វីបានជារូបគេយក Logo មកធ្វើជានិមិត្តសញ្ញារំលេចម៉ូតសម្លៀកបំពាក់ខ្សែក្រវ៉ាត់ ឬកាបូប ព្រោះរូបគេចង់បង្ហាញអ្នកស្លៀកសម្លៀកបំពាក់របស់គេថា នេះវាជាស្នាដៃកូនខ្មែរ ព្រោះ Logo មានសណ្ឋានជាទង់ជាតិខ្មែរ ដោយគ្រាន់តែវាគ្មានរូបអង្គរវត្តតែប៉ុណ្ណោះ ។ ហើយហេតុផលមួយទៀតគឺរូបគេចង់បង្ហាញឱ្យឃើញថា អត្ថន័យនៃពណ៌ធម្មជាតិទាំង2 គឺ ខៀវ និងក្រហមជាតំណាងឱ្យដល់រូបគេនូវការតស៊ូអត់ធ្មត់ក្នុងដំណើរជីវិតទៅរកភាពជោគជ័យនៃសេចក្ដីថ្លៃថ្នូរក្នុងអាជីពការងារដែលផ្ដើមពីបាតដៃទទេ ។

ពិធីធ្វើបង្ហាញម៉ូតសម្លៀកបំពាក់របស់យុវជន Remy កើតមានមិនតិចជាង30លើកហើយទេ នៅតាមតំបន់ក្រុងនានាក្នុងរដ្ឋ California ពិសេសតំបន់ក្រុង Hollywood ជាទីផ្សារទាក់ទាញធំសំរាប់អាជីពគេ ។ យុវជន Remy ដែលបានបញ្ចប់បរិញ្ញាបត្រផ្នែក IT នៅឆ្នាំ 2002 នៃសាកលវិទ្យាល័យ Devry និងអនុបណ្ឌិតសេដ្ឋកិច្ចនៅសាកលវិទ្យាល័យ Keller នៃរដ្ឋ California នាឆ្នាំ 2004 បានថ្លែងថា "វាជានិស្ស័យខ្ញុំដែល បានដើរទៅរកវិជ្ជាជីវៈតែង ឬច្នៃម៉ូតខោអាវដោយខ្លួនឯង គ្មានការបង្ហាត់បង្រៀនពីគ្រូណាទេ គំរូកាត់ក្រណាត់ ឬក្រដាសដែលខ្ញុំច្នៃវាដោយគំនិតខ្លួនឯងបាននាំរូបខ្ញុំឱ្យចេះដឹងពីបញ្ហានេះ" ។ រូបគេបន្តថា "ខ្ញុំធ្លាប់តែឃើញអ្នកប្រកបមុខវិជ្ជានេះភាគច្រើនជាមនុស្សស្ទើរប្រុស-ស្ទើរស្រីដែលខ្មែរយើងហៅថាខ្ទើយចូលចិត្តអាជីពនេះ ។ ប៉ុន្តែខ្ញុំជាប្រុសចំតួក៏អាចមានសមត្ថភាពធ្វើបានដែរ" ។

Remy ប្រាប់ថា "ខ្ញុំចេះជាន់ម៉ាស៊ីនដេរ និងយល់ដឹងខ្លះៗពីការមើលម្ដាយរបស់ខ្ញុំ ដែលគាត់ជាអ្នកស៊ីឈ្នួលដេរខោអាវឱ្យឈ្មួញនៅផ្ទះ ។ ខ្ញុំបានជួយគាត់ម្ដងម្កាលពេលទំនេរពីការសិក្សានៅសាលាដែលខ្ញុំត្រូវជួយកម្លាំងម្ដាយខ្ញុំក្នុងនាមជាកូនប្រុសច្បងនៃប្អូនស្រី 3នាក់ទៀតកាលនៅដើមទសវត្សឆ្នាំ 1990 ពួកខ្ញុំនៅតូចៗដែល ខ្ញុំនៅមានអាយុ 9 ឆ្នាំនៅឡើយ" ។

ម្ដាយ រ៉េមី ឈ្មោះ ញាណ សារឿន អាយុ 53ឆ្នាំ បានប្រាប់ខ្មែរប៉ុស្តិ៍ឱ្យដឹងថា កូនប្រុសគាត់ឧស្សាហ៍ជាមនុស្សយកចិត្តទុកដាក់ហ្មត់ចត់ក្នុងកិច្ចការងារ ហើយការសិក្សាក៏រូបគេ ប្រឹងប្រែងដោយពុំបាច់បង្ខំ ឬភ័យខ្លាចចូលក្នុងអន្ទាក់ក្មេងខូចខិលឡើយ រូបគេឆ្លាត ។ ម្ដាយ រ៉េមី បន្តថា "រតនា កូនខ្ញុំគេឡើយហាត់ និងជួយកិច្ចការងារខ្ញុំពេលនៅផ្ទះក្នុងអាយុជាង10ឆ្នាំ ហើយរៀនសូត្រក៏ពូកែទៀតផង... កូនប្រុសខ្ញុំនេះវាដឹងគុណម្ដាយឪពុកណាស់" ។

យុវជន Remy បានបង្ហើបថា "បើនិយាយពីស្នេហាវិញមិនតិចទេ អ្នកតោងតាមស្រឡាញ់ខ្ញុំ ប៉ុន្តែខ្ញុំតាំងចិត្ត ដោយមិនទាន់រវីរវល់នឹងការតាមសុំស្នេហ៍ពីសំណាក់ពួកស្រីបរទេស ដោយសារខ្ញុំចង់ពង្រឹងជីវភាពគ្រួសារឱ្យល្អប្រសើរសិន ព្រោះណាមួយក៏យើងនៅវ័យក្មេងមិនទាន់ហួសពេលទេ ក្នុងផ្លូវស្នេហា... ខ្ញុំចង់ជួយឪពុកម្ដាយខ្ញុំឱ្យយូរបន្តិច ។ ពីអនុបណ្ឌិតផ្នែកគ្រប់គ្រងសេដ្ឋកិច្ចទីផ្សារក្លាយទៅជាអ្នកតែងម៉ូតបង្កើតគំនិតការច្នៃសម្លៀកបំពាក់ដោយខ្លួនឯង យុវជនរូបនេះក៏ បានឆក់យកពេលវេលាដែលកំពុងមានតម្លៃក្នុងអាជីពបច្ចុប្បន្នឆ្លៀតមកចូលរួមជួយដល់សហគមន៍ខ្មែរនៅ Long Beach ក្នុងផ្នែកកិច្ចការងារសង្គមមនុស្សធម៌តាមរយៈអង្គការ People To People International Long Beach Charter ដែលមានក្រុមនិស្សិតបញ្ញវន្តមួយក្រុមបានរៀបចំឡើងក្នុងការជួយដល់ផ្នែកមនុស្សធម៌ និងវិស័យអប់រំនោះ ។

គួរបញ្ជាក់ថា យុវជន Remy និងក្រុមគ្រួសាររបស់គេបានមករស់នៅសហរដ្ឋអាមេរិកក្នុងនាមជាអតីតជនភៀសខ្លួនខ្មែរនៅតាមជំរំដោយចាកចេញពីជំរំសាយធូមកដល់សហរដ្ឋអាមេរិកនៅ ឆ្នាំ1990 ៕

បើចង់ទំនាក់ទំនង

Remy : (310) 405-3314,

Web Site: www.engineeredbyremy. com ៕

អត្ថបទមនោសញ្ចេតនា

# ក្ដីស្នេហ៍គ្មានទីបញ្ចប់...!



ដោយ : គឹម ភឿន (តពីលេខមុន)

●●●កម្លោះ ឆ្លើយតិចៗ :

- បាទយល់ហើយបង! ។ គាត់បន្តទៅទៀត :

- ឆ្លើយសំនួរបងសិនមក!

វីរៈនិយាយមួយៗ: "គ្មានគំនិតចង់ប្រឆាំងនឹងគាត់ធ្វើអីទេបង! គាត់ជាចៅហ្វាយម្នាក់គួរឱ្យគោរពនឹងស្រឡាញ់ ។ តែរឿងគាត់យកអ្នកទោសមកចងឱ្យប្រជាជនចូលមកពន្លាស់សាច់យ៉ាងនេះវាឃោរឃៅពេក គ្មានបានចំណេញអ្វីសោះ វាធ្វើឱ្យខូចនយោបាយរបស់សាធារណរដ្ឋយើងខ្លាំងណាស់ ។ បងមានចាំទេ កាលឆ្នាំ ១៩៧០ យើងបានទម្លាក់សម្ដេចសីហនុ ចលាចលកើតឡើង មានជនមួយជំពូកបានឆ្លៀតឱកាសសម្លាប់យួនបណ្ដែតទឹកតាមទន្លេមេគង្គ។ សម្លាប់បានតែមួយតំបន្សោះ តែវាអាសោចឈ្មោះរបស់ខ្មែរយើងយ៉ាងធំដុំសម្បើមនៅលើពិភពលោក សមបានយួនទាំងហាណូយ ទាំងព្រៃនគរវាចុះកាសែតរាប់ខែ ធ្វើឱ្យប្រទេសគាំទ្រផ្ដល់ជំនួយឱ្យប្រទេសយើង គេរារែកចង់ឈប់ផ្ដល់ឱ្យតទៅទៀត ព្រោះគេយល់ថា រដ្ឋាភិបាលយើង ប្រជាពលរដ្ឋយើងសុទ្ធតែជាជនឃោរឃៅព្រៃផ្សៃ ! ហើយបងដឹងថាអ្នកណានាំអាថិធ្វើឃាតកម្មកាប់យួនទម្លាក់ទឹកនេះទេ ? បងធមិរបសវីរៈសម្លឹងមុខប្អូនដោយយកចិត្តទុកដាក់ : " ពួកក្រុមខ្មែរដែលស្អប់យួនខ្លាំងនោះអី !" វីរៈឆ្លើយតបមកវិញដោយសំដីយ៉ាងសុភាព : " មិនប្រាកដថាយ៉ាងនោះទេបង បងជ្រាបស្រាប់ហើយថា យួនដែលរស់នៅស្រុកយើងមានពីរពួក (ប័ក្សធំៗ) ពួកទី១ ដែលគាំទ្រខាងព្រៃនគរមិនព្រមធ្វើតាមបញ្ជាពួកយួន ហាណូយ និងវៀតកុងទេ ឯពួកទី២ គេគាំទ្រពួកហាណូយ និងវៀតកុង ហើយគេឧបត្ថម្ភពួកហាណូយ និងវៀតកុង ជាលុយកាក់ជាត្រីសាច់ ស្រូវ អង្ករប្រចាំខែ ។ ឯពួកយួនគាំទ្រខាង ព្រៃនគរ ធីវគីវិញមិនគ្រាន់តែមិនព្រមបង់ឱ្យជាដាច់ខាតជាមួយពួកហាណូយនឹងវៀតកុង។ ហេតុនេះពួកហាណូយ និងវៀតកុងស្អប់ពួកយួនក្រុមនេះណាស់ ។

ពួកហាណូយនឹងវៀតកុងធ្លាប់បានសម្ដេចឪគាំទ្រ តែខាងពួកគាំទ្រព្រៃនគរគ្នាគ្មានបង្អែកមាំគ្មារស់ដោយមិនសូវហ៊ានចេញមុខទេខ្លាចខាងយួនកុម្មុយនិស្តិធ្វើបាបគ្មាននរណាជួយ ។ ដោយជានិច្ចជាកាល មានទំនាស់មនោគម៍វិជ្ជាយ៉ាងនេះ ពួកវៀកកុងយួនខាងជើងដែលកំពុងពួនសម្ងំក្នុងស្រុកខ្មែររង់ចាំតែឱកាសសម្លេះពួកប្រឆាំងនឹងពួកវាចោល ទោះពួកវាជាយួនដូចគ្នាក៏ដោយ ។ ដល់ពេលស្រុកយើងធ្លាក់ក្នុងភាពវឹកវរយ៉ាងនេះ ពួកវាបានដៃក៏ពន្យុះបងប្អូនខ្មែរយើងដែលធ្លាប់តែស្អប់យួន ស្រាប់ផងនោះឱ្យសម្លាប់ក្រុមនេះជំនួសពួកវា ហើយថែមទាំងបោះសាកសពពួកនេះបណ្ដែតទឹកចោល ធ្វើឱ្យរូបភាពនៃអំពើឃោរឃៅរបស់ខ្មែរយើងកាន់តែទ្វេឡើងមួយជាដប់ជាម្ភៃដងពីលើនេះថែមទៀត ព្រោះសារពត៌មាននៅព្រៃនគរ នៅហាណូយ នឹងនៅលើពិភពលោកទាំងមូលយករឿងនេះមកពន្រីកថែមជាច្រើនដងថែមទៀត។ រឿងអាសោចរបស់សាធារដ្ឋខ្មែរប្រែជាធ្ងន់ធ្ងរកតែគាស់សឹងមិនរបើក បងមើល ! អំពើរបស់ពួកវាធ្វើតែមួយសោះ វាបានប្រយោជន៍ច្រើនផ្លូវណាស់សមខ្មែរយើងមិនចេះធ្វើនយោបាយផង តើសាធារណរដ្ឋខ្មែរយើងនឹងរស់បានប៉ុន្មានថ្ងៃទៀត? ។ និយាយបានតែត្រឹមនេះវីរៈក៏នៅឈរស្ងៀមសម្លឹងមុខលោកអ៊ុំសារុណ ហាក់ដូចជាខ្លួនបាននិយាយអ្វីម្យ៉ាងខុសមិនសមគួរ ។ លោកអ៊ុំសារុណសម្លឹងមុខប្អូនធម៍ដោយយកចិត្តទុកដាក់ :

-អាប្អូនឯងបានឯកសារនេះពីណាមកនិយាយ?

-បងភ្លេចថាប្អូនប្រុសបងជាអ្នកកាសែតហើយមែនទេ? ។ លោកអ៊ុំសារុណញញឹមសម្លឹងវីរៈ

-ឯងសមជាអ្នកកាសែតមែនហើយ មិនដែលមានអ្នកណាម្នាក់និយាយប្រាប់បងពីរឿងនេះដូចឯងទេ ទោះបីអ្នកស៊ើបការណ៍ខាងការិយាល័យទី២របស់កងទ័ពក៏ដោយ ។ លោកវរសេនីយ៍ឯកណៃខុន មានសំណាងហើយ ដែលបានឯងមកនៅជាមួយឯងជាទីប្រឹក្សាដ៏ឧត្ដមម្នាក់របស់វា ចាំបងប្រាប់វាឱ្យស្គាល់តំលៃរបស់ឯងសម្រាប់វា ។ ចូរឯងខំប្រឹងយកចំណេះដឹងឯងទាំងអស់មកជួយវា វាជាមិត្តដ៏ល្អម្នាក់របស់បង ។ ***(សូមរង់ចាំអានភាពបន្ត)***

# ស្វែងរកការរំដោះតាមមាគ៌ារបស់ព្រះពុទ្ធ

***ដោយ : សុបិន*** (ភាគ២)

*ពីតិចសាស់* : ការអង្គុយភាវនារបស់ខ្ញុំនៅភូមិកុហ្វម៉ាន់ ក្បែរដាឡាស់ រដ្ឋតិចសាស់ បានរំកិលចូលមកដល់ថ្ងៃទី២ នាដើមខែកញ្ញា ឆ្នាំ ២០០៩ ។ ម៉ោង ៤កន្លះព្រហ៊ាម ជួងត្រូវបានវាយលាន់ឮគ្រលួច យ៉ាងវែងគួរចងចាំ ថាជាពេលវេលាត្រូវក្រោកអង្គុយភាវនានៅក្នុងបន្ទប់ខ្លួនឯងក៏បាន ឬក៏ចូលសាលាអង្គុយរួមក៏បាន សិស្សជាច្រើនពេញចិត្តនឹងអង្គុយរួមជាងដោយសារអង្គុយរួមហាក់ដូចជាមានកម្លាំងអ្វីមួយជួយសិស្សវិប្បសនាឱ្យអង្គុយបានប្រសើរជាងអង្គុយក្នុងបន្ទប់ម្នាក់ឯង ។ ចាប់ពីម៉ោង ៥ កន្លះទៅ ទើបមានគ្រូជំនួយមកអង្គុយជាមួយដោយមានកាសែតសម្លេងសូត្រធម៌ និងការណែនាំរបស់លោកគ្រូ ហ្គោអិនកា បន្តបន្ទាប់គ្នាជារៀងរាល់ម៉ោង ។

នៅក្នុងសាលអង្គុយរួមដ៏ធំស្ងាត់ជ្រងំ មានពន្លឺតិចៗ ស្ទើរមើលគ្នាពុំឃើញ តែមានមនុស្សប្រមាណ ១០០នាក់ អង្គុយនៅទីនោះ ដោយគ្មានសម្លេងអ្វីបន្តិចសោះ ក្រៅពីស្នូរដង្ហើមចេញចូល ។ គ្រូអង្គុយនៅអាសនៈ ពីមុខសិស្សជាប្រមាណ ៧០នាក់ អមដោយសិស្សបំរើប្រុសពីខាងស្ដាំដៃប្រមាណ ១០នាក់ និងសិស្សបំរើស្ត្រីប្រមាណ ១០នាក់ ពីខាងឆ្វេងដៃ ញ៉ាំងឱ្យឃើញថា ពិធីការនេះមានការគ្រប់គ្រងមាំទាំ ហើយប្រាកដប្រជាណាស់ ។ តាំងតែពីដំបូងទីមកវិន័យរបស់មជ្ឈមណ្ឌល



តម្រូវឱ្យខ្ញុំ និងប្ដីខ្ញុំនៅកន្លែងផ្សេងគ្នា មិនអាចទាក់ទងគ្នាបានឡើយ តែខ្ញុំឆ្ងល់ណាស់ថា ហេតុអ្វីបានជាខ្ញុំឃើញប្ដីខ្ញុំទៅអង្គុយនៅមុខគេបង្អស់ខាងស្ដាំដៃគ្រូជំនួយធំ តាំងតែពីថ្ងៃទី១មកហាក់ដូចជាមានតួនាទីសំខាន់អ្វីមួយ ដែលខ្ញុំពុំដែលឮគាត់និយាយប្រាប់ខ្ញុំពីមុនមកសោះ ហើយបញ្ហាអ្វីនីមួយៗរបស់គ្រូ គឺគាត់ជាអ្នកទទួលសម្រាប់សិស្សប្រុស ហើយអ្វីៗដែលទាក់ទងទៅនឹងសិស្សភេទស្រី មានប្រធានខាងស្រីម្នាក់ទៀតជាអ្នកទទួល ។

ក្នុងរយៈពេលប្រារព្ធកម្មវិធីវិប្បសនានេះមាន តែមនុស្សពីរនាក់គត់ ដែលពិគ្រោះបានតែក្នុងករណីចាំបាច់បំផុត គឺប្រធានស្រីសំរាបករណីទីកន្លែងរស់នៅ និងម្ហូបអាហារ រីឯមនុស្សម្នាក់ទៀត គឺគ្រូជំនួយសម្រាប់ករណីឱ្យជួយពន្យល់ពីបច្ចេកវិធីតាមមាគ៌ាព្រះពុទ្ធ ដែលខ្ញុំកំពុងហាត់រៀន ។ **តទៅទំព័រទី ១៧**

# សេដ្ឋកិច្ចកម្ពុជា ដាំក្បាលចុះកាន់តែខ្លាំង

...រយៈពេលជាង ១ ឆ្នាំកន្លងមកនេះ សេដ្ឋកិច្ចនៅកម្ពុជាបានទទួលរងនូវវិបត្តិហិរញ្ញវត្ថុពិភពលោកមួយផ្នែកធំ បានធ្វើឱ្យប្រជាពលរដ្ឋភាគច្រើនត្អូញត្អែរក្នុងការពិបាករកស៊ីទទួលទាន និងបាត់បង់ការងារសម្រាប់ដោះស្រាយជីវភាពជាបន្តបន្ទាប់ ។ អ្វីដែលកាន់តែលំបាកទៀតនោះ គឺតម្រូវការនៅលើទីផ្សារមានការថយចុះ ដែលធ្វើឱ្យសេដ្ឋកិច្ចកាន់តែប្រឈមនឹងផលវិបាកគ្មានការគ្រោងទុក... ។


លោក គាត ឈន់

**សៀមរាប, ខ្មែរប៉ុស្តិ៍ : ឃុត សីហា**

••• ក្នុងសន្និសីទកាសែតប្រចាំឆ្នាំ ស្តីពីបណ្តាញអាស៊ីសម្រាប់សេដ្ឋកិច្ចសេរីនៅខេត្តសៀមរាប លោក គាត ឈន់ រដ្ឋមន្ត្រីក្រសួងសេដ្ឋកិច្ច និងហិរញ្ញវត្ថុបានថ្លែងទៅកាន់អ្នកសេដ្ឋកិច្ចជាតិ-អន្តរជាតិថា "វិបត្តិហិរញ្ញវត្ថុបានធ្វើឱ្យប្រទេសកម្ពុជាជួបប្រទះបញ្ហាជាច្រើនដែលយើងមិនបានរំពឹងទុក" ។ ដូច្នេះដើម្បីដោះខ្លួនឱ្យរួចផុតពីបញ្ហានេះយើងត្រូវតែអនុវត្តនីតិ - រដ្ឋសេដ្ឋកិច្ចទីផ្សារសេរីក្នុងការស្រាយបញ្ហាទាំងអស់ឱ្យវាប្រសើរឡើងវិញ ។

លោក គាត ឈន់ បានថ្លែងទទួលស្គាល់ជាសាធារណៈថា ការធ្លាក់ចុះនៃតម្រូវសម្រាប់ទិញផលិតផលពីកម្ពុជា និងវិបត្តិហិរញ្ញវត្ថុ បាននិងកំពុងតែវាយប្រហារមកលើកម្ពុជាកាន់តែធ្ងន់ ។ ការយល់ពីទំនាក់ទំនងស្របគ្នារវាងនីតិរដ្ឋ និងកំណើនរវាងប្រទេសក្នុងតំបន់ គឺជាការឆ្លើយតបចំពោះវិបត្តិនេះ និងជាការគោរពនីតិរដ្ឋ និងសេដ្ឋកិច្ចសេរី ។

ក្នុងប្រធានបទ "ពុះពារវិបត្តិសេដ្ឋកិច្ច និងវិបត្តិហិរញ្ញវត្ថុសកលនីតិរដ្ឋ គឺជាគន្លឹះសម្រាប់ទីផ្សារសេរី" មានអ្នកជំនាញសេដ្ឋកិច្ចមកពីស្ថាប័នផ្សេងៗគ្នាបានផ្តល់ជាយោបល់ ដើម្បីរកវិធីដោះស្រាយវិបត្តិសេដ្ឋកិច្ចឱ្យបានឆាប់បំផុត ។

លោកបណ្ឌិត Rainer Adam ប្រធានមូលនិធិ Fridrich Naumann Foundation for Freedom (FNF) បានឱ្យដឹងថា ផលិតកម្មសេដ្ឋកិច្ចវាអាចសម្រេចទៅបានក្នុងកម្រិតមួយតូចបំផុត ហើយសិទ្ធិសេរីភាពរបស់ប្រជាពលរដ្ឋក្នុងប្រទេសមិនត្រូវបានគេឱ្យតម្លៃនោះទេ ។

ក្នុងរបាយការណ៍របស់អ្នកសេដ្ឋកិច្ច ក៏បានបញ្ជាក់ថា គ្រាន់តែរយៈពេលជាង1ឆ្នាំកន្លងមកនេះ កម្មករជាង2ម៉ឺននាក់បានបាត់បង់ការងារធ្វើ ហើយពួកគេបង្ខំចិត្តទៅរស់នៅស្រុកស្រែចម្ការជាមួយ និងក្រុមគ្រួសារឯស្រុកកំណើត ។ ក្នុងចំណោមពួកគេដែលជាកម្មការិនីបានងាកទៅបម្រើសេវាកម្មផ្លូវភេទទាំងបង្ខំចិត្តដើម្បីរកលុយមកទិញបាយចំអែតក្រពះ ។

លោក សម រង្ស៊ី ប្រធានគណបក្ស សម រង្ស៊ី ធ្លាប់បានផ្ញើលិខិត ទៅរដ្ឋាភិបាលឱ្យទប់ស្កាត់វិបត្តិហិរញ្ញវត្ថុពិភពលោកឱ្យបានឆាប់ ហើយត្រូវតែបញ្ចេញថវិកាចំនួន500លានដុល្លារ ដើម្បីកុំឱ្យស្ថានភាពសេដ្ឋកិច្ចនៅកម្ពុជាធ្លាក់ចុះធ្ងន់ធ្ងរខ្លាំងពេក ។ ប៉ុន្តែគួរឱ្យសោកស្តាយសំណើរបស់លោក សម រង្ស៊ី ត្រូវបានមន្ត្រីរដ្ឋាភិបាលមិនត្រឹមតែមិនទទួលយកនោះទេ គឺបែរជាសើចចំអកទៅវិញ ដែលទង្វើមួយគួរឱ្យខ្មាសអៀនទៅវិញ ៕


រោងចក្រមួយចំនួនត្រូវបានបិទទ្វារ



គ្រឿងបរិភោគលក់មិនសូវដាច់



ឌឹ ខេមបូឌា ដេលី

The Cambodia Daily

ខួបទី៣៦ ច្បាប់ទី៧៣ ច្បាប់ចេញផ្សាយថ្ងៃសៅរ៍-អាទិត្យ ទី៣-៤ ខែតុលា ឆ្នាំ២០០៩ Saturday-Sunday, October 3-4, 2009

ដំណឹងប្រែសម្រួលពីភាសាអង់គ្លេស ព័ត៌មានក្នុងស្រុក និងអន្តរជាតិ News Translated From English

# អគារគណៈមេធាវីថ្មីនឹងសាងសង់សម្រាប់បណ្ណសារដ្ឋានសាលាក្តីខ្មែរក្រហម

***ដោយ ផាន់ អាណា***

THE CAMBODIA DAILY

•••គណៈមេធាវីបាននិយាយកាលពីថ្ងៃសុក្រថា អគារថ្មីដែលត្រូវចំណាយប្រាក់២ លានដុល្លារសម្រាប់គណៈមេធាវីកម្ពុជា ដែលការកសាងនឹងត្រូវចាប់ផ្តើមនៅក្នុងខណ្ឌសែនសុខ ក្រុងភ្នំពេញ នៅដើមឆ្នាំក្រោយនេះ ក៏នឹងធ្វើជាមជ្ឈមណ្ឌលឯកសារមួយផងដែរ ដើម្បីរក្សាទុកភស្តុតាងនឹងឯកសារច្បាប់នៅក្នុងសំណុំរឿងក្តីដ៏ច្រើនរបស់សាលាក្តីកាត់ទោសខ្មែរក្រហម ។

លោក សួន វិសាល ដែលជាអគ្គលេខាធិការនិងអតីតប្រធានគណៈមេធាវី បានមានប្រសាសន៍ថា គណៈមេធាវី និងរដ្ឋាភិបាលជប៉ុន បានសម្រេចដាក់បញ្ចូលគ្នានូវអគារថ្មីដែលបានគ្រោងទុកនេះសម្រាប់គណៈមេធាវី និងមជ្ឈមណ្ឌលឯកសារសាលាក្តីកាត់ទោសខ្មែរក្រហមនៅក្នុងអគារតែមួយ ។

លោក វិសាល បានមានប្រសាសន៍ថា "គម្រោងសាងសង់នេះ គឺជាផ្នែកនៃការគាំទ្ររបស់ប្រទេសជប៉ុន ចំពោះកំណែទម្រង់ច្បាប់ និងតុលាការរបស់រដ្ឋាភិបាល " ។

គេមិនអាចទាក់ទងក្រុមមន្ត្រីស្ថានទូតជប៉ុនបានទេកាលពីថ្ងៃសុក្រនេះ ។

យោងតាមផែនការសាងសង់ដែលគេបានឃើញកាលពីថ្ងៃសុក្រអគារថ្មីនេះនៅឯកែងផ្លូវលេខ ១១២៩ និងផ្លូវ ១៩៣០ ក្បែរសាកលវិទ្យាល័យភូមិន្ទវិចិត្រសិល្បៈក្នុងសង្កាត់ភ្នំពេញថ្មី និងមានទំហំ ៥០០ ម៉ែត្រការ៉េ ហើយនិងមានកម្ពស់ ៣ ជាន់ ជាមួយនិងកន្លែងចតរថយន្តនៃជាន់ផ្ទាល់ដី ។ **តទៅទំព័រទី ១៦**

# New Bar building To House Khmer Rouge Tribunal Archives

By PHANN ANA
THE CAMBODIA DAILY

The new $2 million premises for the Cambodian Bar Association, construction on which is to begin in Phnom Penh's Sen Sok district early next year, will also house a documentation center to archive the evidence and legal documents in the Khmer Rouge tribunal's voluminous case files, the lawyer's association said Friday.

Suon Visal, the bar's secretary general and former president, said that the bar decided to combine the planned new premises for the association and the Khmer Rouge Tribunal documentation center in a single building.

"This construction project is part of Japan's support to the government's legal and judicial reform," said Mr Visal.

Japanese Embassy officials could not be reached on Friday.

According to building plans seen Friday, the new building at the intersection of streets 1129 and 1930 near the Royal University of Fine Arts in Phnom Penh Thmei commune will occupy a 2,500-squaremeter footprint and be three stories tall with a ground-floor parking lot.

The tribunal documentation center will occupy the first floor and be managed independently of the bar association, according to Mr Visal.

"When the court completes its mission, where and how to keep these documents ? We cannot control these documents because they belong to the state. We are an independent body so we cannot do it" said Mr Visal.

Youk Chhang, director of the Documentation Center of Cambodia, which has been archiving Khmer Rougeera documents since 1995 and provided the bulk of the tribunal's evidentiary record, said that he had been consulted on the nature of the new center, which will be distinct from DC-Cam, which collects all manner of documents not merely those related to the court.

"I was asked about this, and they told me there isn't enough storage space at the National Archives," he said.

Reach Sambath, the tribunal's chief of public affairs, said he was unaware of the plans for the new documentation center but that the court's case files currently contain hundreds of thousands of digitized pages.

"They think this is a model court so people from the outside can see what is related to their future work," he said.



## មន្ត្រីជាន់ខ្ពស់គណបក្សប្រជាជនត្រូវទទួលការកោះហៅទៅតុលាការអន្តរជាតិជំរះក្តីខ្មែរក្រហម



Tribunal Summons Six Government Officials

•លោក ជា ស៊ីម ប្រធានព្រឹទ្ធសភាជាតិ និងជាប្រធានគណបក្សប្រជាជនកម្ពុជា ត្រូវបានកោះអញ្ជើញឱ្យទៅបង្ហាញខ្លួនជាសាក្សី ដោយសហចៅក្រម ម៉ាសែល ឡឺម៉ុងដឺ នៃសាលាជំរះក្តីខ្មែរក្រហម ដោយលិខិតចុះថ្ងៃទី ២៥ កញ្ញា ២០០៩ មុននេះ ។ ជាមួយគ្នានោះមន្ត្រីជាន់ខ្ពស់៥រូបទៀត ក៏បានទទួលដីការអញ្ជើញ ខ្លួន ដូចគ្នាដែរ គឺលោក ប្រធានរដ្ឋសភាលោក ហេង សំរិន, រដ្ឋមន្ត្រីក្រសួងកិច្ចការបរទេសលោក ហោ ណាំហុង, រដ្ឋមន្ត្រីក្រសួងហិរញ្ញវត្ថុ និងព្រឹទ្ធសមាជិក២រូបទៀត គឺលោក ស៊ិន កា និងលោក អ៊ុក ប៊ុនឈឿន ។

លិខិតកោះអញ្ជើញនោះ ពុំមានហត្ថលេខាសហចៅក្រមស៊ើបអង្កេតខ្មែរ គឺលោក យូ ប៊ុនឡេង នោះទេ ។

លោកនាយករដ្ឋមន្ត្រីខ្មែរ ហ៊ុន សែន បានបញ្ចេញប្រតិកម្មសំដែងការមិនពេញចិត្តកាលពីថ្ងៃទី ៨ តុលា ថា " ខ្ញុំមិនយល់ពីទង្វើរបស់តុលាការនេះសោះអ្នកដែលតុលាការកោះហៅនោះ សុទ្ធសឹងជាអ្នកបានរំដោះកម្ពុជាពីដៃខ្មែរក្រហមទាំងអស់..." ។

គួររំលឹកថា កាលខែ កុម្ភៈ ២០០៩ នេះ សហមេធាវី លោក ទួន ជា ឈ្មោះ មីសែល ពីតម៉ាន់ , វីកទ័រ កុព , អន់ទ្រេ អាទូស្តី បានទាមទារឱ្យអញ្ជើញលោក ហ៊ុន សែន , សម្តេច នរោត្តម សីហនុ , លោក ជា ស៊ីម និងលោក ហេង សំរិន មកធ្វើជាសាក្សីរបស់តុលាការម្តងរួចមកហើយ ៕ **ខ្មែរប៉ុស្តិ៍**

..."ដោយសារតែជីវភាពក្រីក្របានរុញច្រានឱ្យបងប្អូនត្រកូល មាស ទាំងអស់ក្លាយជាអ្នកចម្រៀងនៅតាមរង្គសាល និងក្លាយជាតារាសម្តែងកាយវិការឱ្យផលិតកម្មនៅក្រៅប្រទេសទៀតផង។ ទោះបីជាពួកគេបានប្រឹងប្រែងក្រាញននៀលក្នុងពិភពសិល្បៈទាំងស្រុងសារក្តី ប៉ុន្តែពួកគេហាក់ដូចជាមិនសូវមានឈ្មោះបោះសំឡេងឡើយ ដែលធ្វើឱ្យខ្សែ ជីវិតពួកគេនៅតែពុំទាន់ទទួលបានការតាំងចិត្តដំណើមយកពីអតីតកាលនោះឡើយ" ។


បងប្អូនត្រកូល មាស ច្រៀងក្នុងការប្រគុំតន្ត្រី (រូបថត ប៊ុត បូរ)

មាស ឧត្តមរ៉ានី

# ត្រកូលមាស អ្នកចម្រៀងអភ័ព្វ

**ភ្នំពេញ, ខ្មែរប៉ុស្តិ៍ : គីម សារឿន**

•••ក្នុងពេលដែលសម្រាកពីការច្រៀង នៅតាមរង្គសាល ដើម្បីប្តូរយកលុយមកទ្រទ្រង់ជីវភាពក្រុមគ្រួសារនោះ បងប្អូនស្រីត្រកូលមាសទាំង3នាក់បានរៀបរាប់ពីខ្សែជីវិតរបស់ពួកគេថា ពួកគេបានហាក់ចូលក្នុង វិស័យសិល្បៈ ស្រឡាញ់ និងជីវិតក្រខ្សត់មានការជួយជ្រោមជ្រែងពីឪពុកម្តាយផងដែរ ។

មាស ឧត្តមសត្យា អាយុ25ឆ្នាំ ដែលច្រៀងនៅរង្គសាលពិភពរាត្រីបានឱ្យដឹងថា នាងបានហាក់ចូលប្រឡូកក្នុងវិស័យសិល្បៈអស់រយៈពេលជិត 10ឆ្នាំមកហើយ គឺពេល យប់ច្រៀងតាមរង្គសាលនៅពេលទំនេរថតចម្រៀងកាយវិការឱ្យផលិតកម្មមួយចំនួននៅក្នុងស្រុក ដែលធ្លាប់រួមសម្តែងជាមួយតារាល្បីៗជាច្រើនដូច ជា លោក ទេព រិនដារ៉ូ លោក ហាម ឆវ៉ា លោក ជា សំណាង ។

មាស ឧត្តមសត្យា បានបន្តថា រយៈពេលជិត10ឆ្នាំមកនោះ នាងធ្លាប់បានឆ្លងកាត់នូវបទពិសោធន៍យ៉ាងច្រើនក្នុងវិស័យសិល្បៈ ប៉ុន្តែហាក់ដូចជាគ្មានសំណាងល្បីឈ្មោះបោះសំឡេង ដូចគេសោះធ្វើឱ្យជីវភាពរបស់គាត់ហាក់ដូចជា នៅដដែលមិនសូវធូរធារសោះ ។ នៅពេលខាងមុខនាងមានគម្រោងឈប់ពីអាជីពជាអ្នកសិល្បៈ ហើយទៅប្រកបមុខរបរផ្សេងវិញ ។

ចំណែកកញ្ញា មាស ឧត្តមរ៉ានី អាយុ20ឆ្នាំ ក៏បានរៀបរាប់ថា នាងខ្ញុំបានហាក់ចូលប្រឡូកក្នុងវិស័យសិល្បៈតាំងពីនៅរៀនម្ល៉េះរហូតមកដល់ ពេលនេះមានរយៈពេល3ឆ្នាំហើយ ដែលសព្វថ្ងៃនេះនាងធ្លាប់បានច្រៀងនៅរង្គសាល ពិភពរាត្រីជាមួយបងស្រី ។

មាស ឧត្តមរ៉ានី ដែលទើបនឹងប្រឡូកក្នុង វិស័យសិល្បៈបាននិយាយទាំងអំណួតថាមួយរយៈនេះមានស្ថានីយទូរទស្សន៍ជាច្រើនបានអញ្ជើញនាងឱ្យទៅសម្តែងជាញឹកញាប់ដែរ គឺលើកលែងតែស្ថានីយទូរទស្សន៍ CTN ប៉ុណ្ណោះ ដែលនាងមិនទាន់បានឡើងសម្តែង ។ ថ្មីៗនេះ ផលិតកម្មម៉ែសាម៉េត នៅសហរដ្ឋអាមេរិក បានហៅនាងឱ្យថតចម្រៀងកាយវិការជាមួយតារាល្បីៗក្នុងព្រះរាជាណាចក្រកម្ពុជា ហើយបានចេញលក់ចំនួន 3វ៉ុលហើយ ។


មាស ឧត្តមសត្យា


មាស ឧត្តមដាវី

ឧត្តមរ៉ានី បញ្ជាក់ថា នាងមានឈ្មោះបោះសម្លេងមួយរយៈនេះ ក៏ដោយសារតែមានការជួយជ្រោមជ្រែងពីឪពុកម្តាយ និងអ្នកសិល្បៈរៀមច្បងបានជួយគាំទ្រទាំងផ្លូវកាយ និងចិត្ត ។ នៅពេលនេះនាងបានត្រៀមលក្ខណៈគ្រប់គ្រាន់ដើម្បីចេញសម្តែងទាំងនៅក្នុង និងក្រៅប្រទេសក្នុងការរៃអង្គាសប្រាក់ជួយដល់កុមារកំព្រា និងជនក្រីក្រគ្រប់ទីកន្លែងទាំងអស់ ។ ជាពិសេសនាងក៏បានតាំងចិត្តថា នឹងប្រឹងប្រែងឱ្យអស់ពីសមត្ថភាពដើម្បីបម្រើអារម្មណ៍របស់មហាជនឱ្យសប្បាយរីករាយនោះ ។

រីឯកញ្ញា មាស ឧត្តមដាវី ជាប្អូនពៅក្នុងវ័យ18ឆ្នាំ ទើបនឹងចូលច្រៀងនៅរង្គសាលជាមួយបងស្រី ក៏បានរៀបរាប់ពីប្រវត្តិប្រហាក់ប្រហែលនឹងបងស្រីដែរ គឺនាងចូលចិត្តវិស័យសិល្បៈតាំងពីនៅតូចម្ល៉េះ ។ ពេលនេះនាងចង់ក្លាយតារាចម្រៀងល្បីដែរ ប៉ុន្តែមិនដឹងថាទៅរួច ឬអត់នោះទេ ។ នៅពេលសួរពីបំណងទៅថ្ងៃអនាគតនាងបានបញ្ជាក់ថា ចង់ក្លាយជាតារាបង្ហាញម៉ូដវិញ ពីព្រោះនាងមានចំណូលចិត្តខ្លាំងជាង ។ នាងឧត្តមដាវី ហាក់ដូចជាអស់សង្ឃឹម ពីព្រោះសព្វថ្ងៃទាំង3នាក់បងប្អូនត្រូវបាត់បង់ការងារ ដោយសារតែថៅកែមិនសប្បាយចិត្តបញ្ឈប់លែងឱ្យច្រៀងនៅតាមរង្គសាលដូចមុន ហើយរកការងារធ្វើមិនទាន់បានធ្វើឱ្យជីវភាពកាន់តែដុនដាប ។

ស្រ្តី ហង្ស សុធា ក្នុងវ័យ50ឆ្នាំ ដែលត្រូវជាម្តាយបានឱ្យដឹងថា នាងខ្ញុំជាម្តាយ និងឪពុកជាអ្នកសិល្បៈតាំងពីដូនតា ដូច្នេះកូនចៅធំឡើងក៏បណ្តុះចិត្តគំនិតឱ្យវាមានចំណេះដឹងផ្នែកអ្នកចម្រៀងនេះ ហើយក្នុងចំណោម កូនទាំង5នាក់ គឺ4នាក់ជាអ្នកចម្រៀង និងកូនប្រុសម្នាក់ក្លាយជាអ្នកបង្ហាញម៉ូដ ។

អ្នកស្រី ហង្ស សុធា បន្តថា កូនចៅរបស់គាត់ដែលក្លាយជាអ្នកសិល្បៈនេះ គឺក្រោមការបង្ហាត់បង្រៀនរបស់ខ្ញុំផង និងគ្រូបង្រៀនល្បីៗដែលមានអាជីពជាអ្នកចម្រៀងផងដូចជា សួង ពុទ្រា និងមួយចំនួនទើបចេញទៅសម្តែង ។ ពេលនេះនាងខ្ញុំសូម អំពាវនាវដល់ផលិតកម្មនានាទាំងក្នុង និងក្រៅប្រទេសដែលត្រូវការផ្នែកចម្រៀង និងអ្នកថតចម្រៀងកាយវិការមេត្តាជួយផ្តល់ឱកាសឱ្យកូនចៅគាត់បានទៅសម្តែងនឹងគេផង ។ សម្រាប់នាង ខ្ញុំជាម្តាយកំពុងតែជួយជំរុញឱ្យពួកគេមានឱកាសក្លាយខ្លួនជាតារាល្បីក្នុងអារម្មណ៍មហាជនគ្រប់ពេលវេលា និងសំណូមពរឱ្យមហាជនជួយគាំទ្រសិល្បៈកាន់តែខ្លាំងឡើងៗ ៕

# A.B.C MONEY TRANSACTION, INC

# $ ក្រុមហ៊ុនផ្ញើប្រាក់ A.B.C



## តម្លៃសំរាប់ផ្ញើទៅស្រុកខ្មែរ

| | | ភ្នំពេញ | តាមខេត្ត |
|---|---|---|---|
| ផ្ញើ $100 | យកកម្រៃ | $4.50 | $5.50 |
| $200 | យកកម្រៃ | $9.00 | $11.00 |
| $300 | យកកម្រៃ | $13.50 | $16.50 |
| $500 | យកកម្រៃ | $16.00 | $17.00 |
| $1000 | យកកម្រៃ | $25.00 | $26.00 |
| $1500 | យកកម្រៃ | $35.00 | $36.00 |
| $2000 | យកកម្រៃ | $42.00 | $43.00 |
| $2200 | យកកម្រៃ | $46.00 | $47.00 |



សូមកុំភ្លេចទាក់ទងការិយាល័យក្រុមហ៊ុន ABC ដែលនៅជិតលោកអ្នក ប្រសិនបើមានបំណងចង់ផ្ញើប្រាក់ទៅស្រុកខ្មែរ ឬក៏ទូរស័ព្ទមកយើងតាម

### នៅរដ្ឋ VIRGINIA សូមទាក់ទង

**ABC MONEY TRANSATION ,INC.**
8 locations to serve you in Virginia

- 6757 Willson Blvd.-Ste.#25 Tel : 703.534.2600
- 4291 Holland Rd-Ste.#111 Tel : 757.474.9400
- 10428 Ridgefield Pkwy Tel : 804-740-2454
- 2519 W . Mercury Blvd . Tel : 757.265.6305
- 23520 Overland Dr. Tel : 703.661.6666
- 6314 Rigsby Rd. Tel : 804.288.2988
- 7252 Arlingston Blvd . Tel : 703.641.0778
- 6217 W. Broad St. Tel : 804.288.6988

**ARIZONA**
◆4215 N 19th Ave. . Tel : 602.266.6744

**GEOERGIA**
◆ 4897 Buford Hwy. Ste. 202. Tel: 770.457.7888

**ILLINOIS**
◆4871 N. Broadway . Tel :773.989.7332

**MASSACHUSETTE**
◆ 996 Dorchester Ave. Tel:617.825.9380
◆ 1365-1377 Dorchester Ave. -Ste.4,Froor 1 .Tel : 617.265.4600

**MINNESOTA**
◆ 2718 Nicollet Ave . S.- Ste. 102 B
◆ Tel : 612.871.4731
◆ 6350 Brooklyn Blvd . Tel : 763.503.3947

**NORTH CAROLINA**
◆ 3000 Central Ave. Ste . #9 . Tel : 704-532-4420

**OREGON**
◆6908 N.E. Sandy Blvd . Tel : 503.281.8088

**PHILADFELPHIA**
◆5520 . Whitaker Ave. -Unit 2 . Tel : 215.831.9794
◆571 Adams Ave . Ave.#4 . Tel : 215.342.6623

**TEXAS**
◆1818 E . Pioneer Pkwy. Ste.156 . Tel : 317.461.1461
◆2615 W . Pioneer Pkwy. Ste.136 . Tel : 214.788.2817
◆5302 E . Belknap St.- Ste.D6 . Tel : 817.831.4836
◆3538 W . Walnut St. Tel : 972.272.2253
◆11205 Bellaire Blvd . Tel : 281.561.6600
◆10909 Scarsdale Blvd . Tel : 281.481.2700
◆13480 Veterans Memorial Dr.-Ste. F2. Tel: 281.587.0807

**WASHINTON STATE**
◆766 S.38th St,. Tel : 253.475.2847
◆3818 S.Graham St.-Ste. C Tel : 206.721.2070

## ក្រុមហ៊ុនទទួលផ្ញើប្រាក់ទៅកម្ពុជា

ABC ជាក្រុមហ៊ុនផ្ញើប្រាក់តែមួយគត់នៅស្រុកខ្មែរ ដែលមានការប្រគល់ប្រាក់ដល់ផ្ទះ

- ស្របច្បាប់
- រហ័សទាន់ចិត្ត
- ធានារ៉ាប់រង និងជូនប្រាក់ទៅដល់ផ្ទះ
- កុំរ៉ៃផ្ញើចោលជាងកន្លែងដទៃ

### ក្រៅពីការផ្ញើប្រាក់ក្រុមហ៊ុនមានលក់

PHONE CARD និង PINLESS សំរាប់ទូរស័ព្ទទៅស្រុកខ្មែរ ដែលផលិតដោយក្រុមហ៊ុន ABC ផ្ទាល់ មានគុណភាពល្អ ហើយជាពិសេស CARD របស់យើងនឹងទុកបានរហូត មិនអស់កំណត់កាលឡើយ ( NEVER EXPIRED) ។

ត្រូវការអ្នកសហការ (AGENTS ) ជាមួយយើងទូទាំងសហរដ្ឋអាមេរិក និងបានទទួលប្រាក់ចំណូលយ៉ាងខ្ពស់ !

ព័ត៌មានបន្ថែមសូមទាក់ទង CHET THACTHER តាមទូរស័ព្ទ និងអាស័យដ្ឋានខាងក្រោម :

Office : 714-590-8740 Fax : 714-590-8776
Cell: 714-603-3509 Toll Free : 1-877-939-0110

ABC MONEY TRANSATION, INC
12019 Garden Grove Blvd., Ste.#204
Garden Grove , CA 92843
chesterthatcher@yahoo.com